www.yerngshare.blogspot.com

**គម្រោងបង្ហាញបច្ចេកវិទ្យាដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប**

( TSTD — TA 7305-CAM )

# បច្ចេកទេសដាំដំណាំ




*ខែ សីហា ឆ្នាំ ២០១៣*

www.telecentercambodia.org/

# អារម្ភកថា

គម្រោងបង្ហាញបច្ចេកវិទ្យាដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប (TSTD) ជាគម្រោងជំនួយ បច្ចេកទេស ដែលផ្តល់សហ-ហិរញ្ញប្បទានឥតសំណងសម្រាប់អនុវត្ត ដោយរដ្ឋាភិបាលហ្វាំងឡង់ មូលនិធិដៃគូអ៊ី-អាស៊ី និង ចែករំលែកពុទ្ធិនៃសាធារណៈរដ្ឋកូរ៉េ និង ធនាគារអភិវឌ្ឍន៍អាស៊ី (អេឌីប៊ី) ។ រាជរដ្ឋាភិបាលកម្ពុជា ចូលរួមបដិភាគមិន មែនជាថវិកា (ធនធានមនុស្ស ការិយាល័យបំពេញការងារ...) សម្រាប់អនុវត្តគម្រោង។ ធនាគារអភិវឌ្ឍន៍អាស៊ី ជាអ្នក ចាត់ចែងប្រតិបត្តិការផ្ទាល់ ជំនួសមុខឲ្យម្ចាស់ជំនួយ ។ គម្រោង កំពុងធ្វើការសាក ល្បងបង្ហាញបច្ចេកវិទ្យាកសិកម្ម និង ផ្តល់សេវាព័ត៌មានជនបទ ដើម្បីបង្កើន និង ពង្រីកប្រាក់ប្រភពចំណូលរបស់គ្រួសារកសិករខ្នាតតូច ក្នុងខេត្ត កំពង់ចាម កំពង់ធំ សៀមរាប និង បន្ទាយមានជ័យ។

គម្រោងបានអនុវត្តកម្មវិធីធ្វើបង្ហាញបច្ចេកវិទ្យាផលិតកម្មដំណាំបន្លែ ក្នុង ខេត្តកំពង់ចាម និង ខេត្តកំពង់ធំ ដោយសហការជាមួយ ក្រុមហ៊ុនគ្រាប់ពូជបន្លែ អ៊ីស្តវេស្ទ៍ស៊ីដ អ៊ិនធើណេសិនណល (East West Seed International) ក្នុងរូបភាពកិច្ចសហការភាពជាដៃគូរសាធារណៈ-ឯកជន ។ អ្នកបច្ចេកទេសរបស់ក្រុមហ៊ុន បាន សហការជាមួយមន្ត្រីកសិកម្ម នៅតាមមូលដ្ឋានក្នុងខេត្តទាំងពីរ បានអនុវត្តកម្មវិធីធ្វើបង្ហាញ និងបណ្តុះបណ្តាល បច្ចេកទេសផលិតកម្មបន្លែ ដោយប្រើវិធីសាស្ត្របង្រៀនឱ្យធ្វើអនុវត្តជាក់ស្តែង (សាលារៀនបន្លែកសិករ) ជាជំហានៗ តាមដំណាក់កាលលូតលាស់ ពេញមួយវដ្តដំណាំ។

សៀវភៅណែនាំបច្ចេកទេសសម្រាប់កសិករ ស្តីពី ***បច្ចេកទេសដាំពោតផ្អែម*** នេះ បានរៀបចំឡើងដើម្បី ផ្តល់នូវចំណេះដឹង និង ចំណេះធ្វើជាក់ស្តែង ដល់គ្រួសារកសិករ ស្តីពី ការដាំដំណាំនេះ តាមបច្ចេកទេសថ្មី ដែលអាច ដាំបានគ្រប់រដូវ ពេញមួយឆ្នាំ។ បច្ចេកទេសថ្មីនេះ ជួយគ្រួសារកសិករ ឲ្យមានប្រភពចំណូលថ្មី ជាប្រចាំបន្ថែមមួយ ទៀត ដោយប្រើប្រាស់ឱ្យកាន់តែអស់លទ្ធភាពនូវធនធានដី-ទឹក និង ធនធានផ្សេងទៀតដែលគ្រួសារមាន ។

ខ្លឹមសារក្នុងសៀវភៅណែនាំបច្ចេកទេសសម្រាប់កសិករនេះ បានរៀបចំឡើងដោយក្រុមអ្នកបច្ចេកទេសអនុវត្ត របស់ក្រុមហ៊ុនគ្រាប់ពូជបន្លែ អ៊ីស្តវេស្ទ៍ស៊ីដ សម្រាប់កសិករ ដោយផ្អែកលើជំហានអនុវត្តជាក់ស្តែង និង បទពិសោធន៍ ទទួលបានជោគជ័យក្នុងការដាំដំណាំនេះ រយៈពេលពីររដូវកន្លងមក នៅក្នុងខេត្តទាំងពីរ ។ ក្នុងការរៀបឯកសារនេះ មានការចូលរួមយ៉ាងសកម្ម ក្នុងការផ្តល់គំនិត និង ការសម្រួល និងបន្ថែមខ្លឹមសារបច្ចេកទេស ក៏ដូចជា ផ្នែករចនាបថ សរសេរ និង ប្រាស្រ័យទាក់ទងផ្សព្វផ្សាយ ការកត់ត្រាសំរាប់គ្រប់គ្រងកសិដ្ឋាន និង វិភាគសេដ្ឋកិច្ចផលិតកម្ម របស់ លោក **លីវ លាងហ៊ី** ប្រធានក្រុមទីប្រឹក្សាគម្រោង និង អ្នកជំនាញផ្នែកផ្ទេរ និង ផ្សព្វផ្សាយបច្ចេកវិទ្យា។

ការអនុវត្តន៍កម្មវិធីធ្វើបង្ហាញ និងបណ្តុះបណ្តាល ស្តីពី ***ការដាំដំណាំពោតផ្អែម*** តាមបច្ចេកទេសថ្មីនេះ អាច ទទួលបានជោគជ័យ ដោយសារមានការគាំទ្រជាប់ជាបន្តពី ថ្នាក់ដឹកនាំ និង បុគ្គលិកក្រុមទីប្រឹក្សាគម្រោង ពី លោក **ប្រាក់ ថាវអមិដា** ប្រធានសម្របសម្រួលគម្រោង TSTD និង ជាអគ្គលេខាធិការរង នៃក្រសួងកសិកម្ម រុក្ខាប្រមាញ់ និង នេសាទ និង ពីមន្ទីរកសិកម្មខេត្ត ទាំងពីរ។

ខែ សីហា ឆ្នាំ ២០១៣

**<u>ទំនាក់ទំនងព័ត៌មានបន្ថែម</u>**

លោក លីវ លាងហ៊ី ប្រធានក្រុមទីប្រឹក្សា / អ្នកជំនាញផ្នែកផ្ទេរ និង ផ្សព្វផ្សាយបច្ចេកវិទ្យា នៃគម្រោង TSTD
អ៊ីម៉េល : livleanghy@gmail.com

## ១ ការរៀបចំដី និង ធ្វើរង



- សំអាតដីចំការ និង រើសស្មៅចេញឱ្យអស់។
- ភ្ជួរ រាស់ដីឲ្យបានម៉ដ្ឋល្អ ហើយហាលឱ្យបានពី១០ ទៅ១៥ថ្ងៃ ។
- ភ្ជួរដី (គោក្របី ឬ គោយន្ត) ១០ ទៅ ២០ សង់ទីម៉ែត្រ។

### ការលើករង

ក្នុងការដាំពោតផ្អែមជារង កសិករអាចដាំជាជួរ (រង) តាមពីរ របៀប គឺ ដោយរងទោល (១ជួរ) និង រងដាំពីរជួរ។

### ក. រងដាំពីរជួរ

- ទទឹង ១ ម៉ែត្រ និង បណ្តោយ ទៅតាមលទ្ធភាពដី តែមិនគួរឱ្យលើសពី ៥០ ម៉ែត្រឡើយ ពីព្រោះពិបាក ក្នុងការ ថែទាំ ដូចជា ស្រោចទឹក បោចស្មៅ ជាដើម។
- កំពស់ នៅរដូវប្រាំង ពី២០ ទៅ ៣០សង់ទីម៉ែត្រ ហើយនៅរដូវវស្សា ពី ៣០ ទៅ ៥០សង់ទីម៉ែត្រ
- ការដាក់ជី ដាក់ជីលាមកសត្វដែលពុកផុយ ឬ កំប៉ុស្តិ៍ ចំនួន២គីឡូក្រាម លើផ្ទៃដីរង១ម៉ែត្រការ៉េ នៅតាមចន្លោះចង្អូរជួរទាំងពីរ រួចហើយលប់ដីគ្របឲ្យជិតវិញ។









ប្រើខ្សែទាញតំរង់ ដើម្បីចោះរណ្តៅដាំកូន និង ប្រើខ្នាតសម្រាប់ចោះរណ្តៅដាំ ពីគុម្ពមួយ ទៅគុម្ពមួយ

(ចន្លោះគុម្ព ពី ៣តឹក ទៅ៤,៥តឹក)

**<u>ការធ្វើរង ដោយប្រើចំបើងគ្របរង</u>**








## ២. វិធីដាំដុះ

មុនពេលជ្រើសរើសពូជពោតដាំ កសិករគួរតែពិនិត្យពិចារណាលើ ៖

ក. ពូជធន់ទ្រាំទៅនឹងក្បេត្របរិស្ថានក្នុងតំបន់ដាំដុះ (សត្វល្អិត និងជម្ងឺ)
ខ. ពូជផ្តល់ទិន្នផលខ្ពស់ (ពូជកូនបង្កាត់ ដូចជាពូជ អ៊ីហ្គី របស់ក្រុមហ៊ុន អ៊ីវេស្តស៊ីដ អ៊ីនធើណេសិណល)
គ. ពូជដែលមានអត្រាដុះ ចាប់ពី ៨៥%ឡើងទៅ។

កសិករអាចដាំពោត ដោយគ្រាប់ផ្ទាល់ (ក្នុងរណ្តៅ) ឬ បើមានលទ្ធភាព ដាំដោយកូនបណ្តុះ ។ បន្ទាប់ពីជ្រើសរើសពូជបានហើយ កសិករអាចដាំដោយគ្រាប់ផ្ទាល់ ឬក៏ បណ្តុះកូនជាមុនសិន កាន់តែប្រសើរ ។ ចន្លោះពីគុម្ពមួយទៅគុម្ពមួយ គួរតែមានចំងាយ ពី ៣៥ សង់ទីម៉ែត្រ (៣,៥ តឹក) ទៅ ៤៥ សង់ទីម៉ែត្រ (៤,៥ តឹក) ដោយដាក់ដាំក្នុងមួយ រណ្តៅ ១ដើម ឬក៏ ១ គ្រាប់ ។ កសិករ គួរតែបណ្តុះកូនបម្រុងទុកចំនួន ពី២០ ទៅ ៣០ ភាគរយ នៃគ្រាប់សរុប ដើម្បីទុកជួសនៅពេលបាត់ដើម(កូនងាប់) ឬ គ្រាប់មិនដុះល្អ។

## ៣. ការថែទាំ

### ក. ការដាក់ជីបំប៉ន (ជីគីមី)

បន្ទាប់ពីដាំបានហើយ កសិករគួរតែយកចិត្តទុកដាក់លើការថែទាំ និងដាក់ជីបំប៉ន។ ខាងក្រោមនេះ ជារបៀបនៃការដាក់ជីគីមី និង ការប្រើប្រាស់ជីបំប៉ន ៖

| ចំនួនថ្ងៃនៃការដាក់ជី | ប្រភេទជី | បរិមាណជី | កន្លែងដាក់ជី |
|---|---|---|---|
| ទ្រាប់បាត<br>មុនពេលដាំ ១៥ថ្ងៃ | លាមកសត្វពុកផុយ ឬ កំប៉ុស្តិ៍ | ២គីឡូ ក្នុង<br>១ ម៉ែត្រការ៉េដីរង | កប់ជីកណ្ដាលរង<br>(ពេលរៀបចំរងដាក់គម្របរង) |
| មុនពេលដាំ ពី ៧ ទៅ១០ថ្ងៃ | ជី ២០-២០-១៥ | ៥ក្រាម ក្នុង១គុម្ព | មួយដើម ទ្រាប់បាត |
| បន្ទាប់ពីដាំ បាន<br>ពី ៧ ទៅ ១០ថ្ងៃ | ជី ៤៦-០-០ (ជី អ៊ុយរ៉េ ) | ១,៥ក្រាម ក្នុង១គុម្ព | ចំងាយ ពី០,៥ ទៅ ១ តឹក ពីគល់ ពោត<br>(២រន្ធ ក្នុង១ ដើម) |
| បន្ទាប់ពីដាំ បាន<br>ពី២៨ ទៅ ៣០ថ្ងៃ | ជី ២០-២០-១៥ (ចំរុះ) | ៥ក្រាម ក្នុង១គុម្ព | ចំងាយ ពី១,៥ ទៅ ២,៥តឹក ពីគល់ពោត<br>(១រន្ធ ក្នុង១ ដើម) |
| បន្ទាប់ពីដាំ បាន<br>ពី៤៨ ទៅ ៥០ថ្ងៃ | ជី ២០-២០-១៥ +<br>ជី ០-០-៦០ | ១០ ក្រាម ក្នុង១គុម្ព | ចំងាយ ពី១,៥ ទៅ ២,៥តឹក ពីគល់ពោត<br>(១រន្ធ ក្នុង ១ដើម) |





*១ កូនស្លាបព្រាជ័រ មានទំងន់ប្រហែល ១,៥ ក្រាម*

នៅចន្លោះនៃការដាក់ជី កសិករចាំបាច់ត្រូវបាញ់ជីទឹកបំប៉ន យ៉ាងហោចណាស់ នៅថ្ងៃទី ១៣ ឬ ទី១៤ និង ថ្ងៃទី៣៥ ឬ ៣៧ បន្ទាប់ពីដាក់ដាំ។

### ខ. អនាម័យ និង ថែទាំទឹក

កសិករត្រូវសំអាតស្មៅ ដែលដុះនៅក្នុងចំការ និង ពិនិត្យចំការពោតឲ្យបានទៀងទាត់។ នៅពេលដែលពោតលូតលាស់ខ្ពស់ (ពី ១ ទៅ ១,៥ម៉ែត្រ) ហើយកសិករគួរតែកាត់ស្លឹកផ្នែកខាងក្រោម ឬ ស្លឹកដែលចាស់ៗចោល ដើម្បីឲ្យខ្យល់ចេញចូលបានល្អ និង កាត់បន្ថយចំនួនសត្វល្អិតចង្រៃ ។

ទឹកជាផ្នែកមួយដ៏សំខាន់របស់ដំណាំ។ ដូចនេះ កសិករត្រូវពិនិត្យដី និង *តម្រូវការទឹក*របស់ដំណាំពោត ។ ចំពោះការផ្ដល់ទឹកឲ្យដំណាំពោត គឺមិនគួរតិចពេក ឬ ច្រើនពេកទេ ពីព្រោះវាអាចបណ្ដាលឱ្យដើមពោត ងាប់បាន។

## ៤. ជម្ងឺ និង សត្វល្អិត កើតលើដំណាំពោត

### ក. ជម្ងឺ និង វិធីការពារ

ក១. ជម្ងឺទុំលឿងស្លឹក



| រោគសញ្ញា | វិធីការពារ |
|---|---|
| -ស្លឹកពណ៌លឿង<br>-ឆ្លងពីដើមមួយទៅដើមមួយទៀត ដោយសារខ្យល់ និង ទឹកភ្លៀង<br>-នៅរដូវត្រជាក់ ជម្ងឺនេះកើតលឿន | -ប្រើពូជដែលធន់ទ្រាំនឹងជម្ងឺនេះ<br>-កាត់ ឬ ដកដើមណាដែលមានជម្ងឺចោល ដោយដុត ឬ កប់ដីចោល ឱ្យឆ្ងាយពីចំការ។<br>-ប្រើថ្នាំការពារដូចជា មេតាឡាកស៊ី ឬ ថ្នាំព្យាបាលជម្ងឺផ្សិតអនុញ្ញាតិឱ្យប្រើប្រាស់ផ្សេងទៀត ដែលមានប្រសិទ្ធភាពខ្ពស់ជាងនេះ។ |

ក២. ជម្ងឺរលួយដើម  (Phythium Stalk Rot)



| រោគសញ្ញា | វិធីការពារ |
|---|---|
| -ដើមខ្ចី/ទាប ជាងធម្មតា<br>-មានស្នាមជាំលើដើម (អាចគល់ ឬ ពាក់កណ្តាលដើម)<br>-កើតលឿននៅពេលរដូវក្តៅ ហើយសើម។ | -ប្រើវិធីស្រោចស្រព ឲ្យបានសមស្រប<br>-កាត់ដើមណាដែលទទួលរងជម្ងឺចោល ដោយដុត ឬ កប់ដី ឱ្យឆ្ងាយពីចំការ។<br>-ប្រើថ្នាំការពារ ដូចជា ថ្នាំ មេតាឡាកស៊ីល (Metalaxyl) ឬ ថ្នាំព្យាបាលជម្ងឺផ្សិតអនុញ្ញាតិឱ្យប្រើប្រាស់ផ្សេងទៀត ដែលមាន ប្រសិទ្ធភាពខ្ពស់ជាងនេះ។ |

ក៣. ជម្ងឺ រលាកដំបៅដើម (Banded Leaf & Sheath Blight)



| រោគសញ្ញា | វិធីការពារ |
|---|---|
| -វាចាប់ផ្តើមឡើងពីថ្នាំងទៅមុន (ធ្វើឲ្យកន្លែងកើតជម្ងឺមានលក្ខណៈស្ងួត ហើយក្រៀម)។<br>-វារីករាលដាលបានគ្រប់ពេលវេលា និង ក្នុងគ្រប់លក្ខខណ្ឌទាំងអស់នៃបរិស្ថាន | -ប្រើពូជដែលធន់ទ្រាំ<br>-កាត់ស្លឹក និងកន្លែងដែលទទួលរងចោល ហើយដុត ឬ កប់ដីចោល ឱ្យឆ្ងាយពីចំការ នៅពេលឃើញមានជម្ងឺកើតតិចដំបូង<br>-ប្រើថ្នាំការពារ ដូចជាថ្នាំ បិណូមីល, កាបិនដាស៊ិម, ឌីហ្វីណូកូណាហ្សូល ឬ ថ្នាំព្យាបាលជម្ងឺផ្សិតផ្សេងទៀត ដែលមានប្រសិទ្ធភាពខ្ពស់ជាងនេះ។ |

## ខ. សត្វល្អិត និង វិធីកំចាត់

### ខ១. ដង្កូវកាត់ស្លឹក (Cut Warm )

ដង្កូវនេះ បំផ្លាញស្លឹក និង ផ្នែកនៃផ្លែ (សក់ពោត)។ ទំហំរន្ធបំផ្លាញ នៅលើស្លឹក កាន់តែធំ ហើយ ការលូត របស់ដើមពោត មានលក្ខណៈយឺត។



ដង្កូវកាត់ស្លឹក




មេអំបៅដង្កូវកាត់ស្លឹក

**វិធីកំចាត់**

- កាត់ចោលនូវផ្នែកដែលបំផ្លាញចោល ដោយដុត ឬ កប់ចោលក្នុងដី ឱ្យឆ្ងាយពីចំការ។
- ភ្ជួរដីឲ្យបានជ្រៅ
- ប្រើអន្ទាក់ស្អិត ចង់ពណ៌លឿង
- ប្រើប្រាស់ថ្នាំពុលកសិកម្ម ដូចជា ៖

  ថ្នាំ ក្លរ៉ាន់ត្រានីលីប្រុល Chloranthraniliprol, អ៊ីនដូកហ្សាកាប Indocxacarb, ស៊ីភឺមេទ្រីន cypermethrin, មេតូមីល methomyl និង ហ្វីប្រូនីល fipronil។

១២. ដង្កូវស៊ីរូងចោះពោត( Asian Corn Bore)




| រោគសញ្ញា | វិធីកំចាត់ |
|---|---|
| - កូនញាស់ ហើយស៊ីទំលុះពីគល់ ទៅផាង<br>- វាបំផ្លាញគ្រប់កន្លែងនៃដើមពោត (ផាង ស្លឹក ដើម ផ្លែ និង ផ្កា) | - កាត់ចោលនូវផ្នែកដែលបំផ្លាញចោល ឬ ចាប់ដង្កូវដោយដៃ ហើយដុត ឬ កប់ចោល ឱ្យឆ្ងាយពីចំការ។<br>- ភ្ជួរដីឲ្យបានជ្រៅ<br>- ប្រើអន្ទាក់ស្អិត ពណ៌លឿង និង អន្ទាក់ភ្លើង<br>-ប្រើប្រាស់ថ្នាំពុលកសិកម្ម ដូចជា ថ្នាំ ក្លរ៉ាន់ត្រានីលីប្រុល Chloranthraniliprol, អ៊ីនដូហ្សាកាប Indocxacarb, សាយភឺមេទ្រីន cypermethrin, មេតូមីល methomyl និង ហ្វីប្រូនីល fipronil ។ |

## ៥. ការប្រមូលផល

ពោតផ្អែម អាចប្រមូលបានរយៈពេល ៦៥ ទៅ ៧៥ ថ្ងៃ បន្ទាប់ពីដាំគ្រាប់ (សើមផ្អាប់) ។ តាមធម្មតា ក្នុង ១ ដើម អាចប្រមូលផល បាន១ ផ្លែ ។ កសិករ អាចទុកពីរផ្លែ ក្នុង ១ ដើម ប៉ុន្តែផ្លែមិនសូវធំ។



## ៦. ការកត់ត្រាចំណាយចំណូលផលិតកម្ម និង វិភាគសេដ្ឋកិច្ច

### ៦.១. ការកត់ត្រាចំណាយចំណូលផលិតកម្ម

ការកត់ត្រាទុកនូវតួរលេខន៍ចំណាយចំណូល មានសារៈសំខាន់ណាស់ ។ មាន ហេតុផលជាច្រើន ដែលគេចាំបាច់ត្រូវកត់ត្រាជាប្រចាំ ពីចំណាយចំណូលផលិតកម្ម ។ ហេតុផលចំបងមួយចំនួន មានដូចជា៖

ប្រសិនបើគ្មានការកត់ត្រាពីអ្វីដែលត្រូវបានចំណាយ ហើយអ្វីដែលបានចំណូលនោះទេ យើងនឹងមិនអាចដឹងបានទេ ថាតើ មុខជំនួញ (ដូចជា *ការដាំបន្លែ*) របស់យើង ខាត ឬ ចំណេញ? ចូរចងចាំថា *ការទទួលបានប្រាក់ចំណូលរាល់ថ្ងៃ មិនមានន័យថា យើងបានទទួលប្រាក់ចំណេញនោះទេ* ។

ប្រសិនបើយើងដឹងច្បាស់ពីមុខចំណាយ និង មុខចំណូលច្បាស់លាស់ យើងអាចរិះរកវិធីដើម្បី គ្រប់គ្រងជំនួញឲ្យបានកាន់តែល្អ កាន់តែបានចំណេញច្រើន។

កំណត់ត្រាអាចត្រូវប្រើប្រាស់សម្រាប់ធ្វើផែនការចំណាយនៅពេលអនាគត ពីព្រោះយើងអាចដឹងពីតំលៃ និង ធនធានដែលត្រូវចំណាយ ។

គោលដៅចំបងនៃធ្វើជំនួញ ឬ ផលិតកម្មអ្វីមួយ គឺរកបានចំណេញ និង កាន់តែចំណេញច្រើន ។ ប្រាក់ចំណេញ ជា ផលសង (ឬ ភាពខុសគ្នាជាវិជ្ជមាន) រវាង ប្រាក់ចំណូល (បានមកពីការលក់ផលិតផល ឬ សេវាកម្ម) និង ប្រាក់ចំណាយទាំងអស់ ។ ចំណាយ អាចបែងចែកជា ២ ប្រភេទ គឺ ៖

(១) ចំណាយថេរ (មិនប្រែប្រួល*) គឺជា ចំណាយមូលធន ដែលប្រើមួយសារមិនខូច ឬ មិនអស់ ដូចជា ដី សំណង់ ឃ្លាំង សម្ភារៈសាងសង់ទ្រើងត្រសក់ ធុងស្រោច ម៉ាស៊ីនបូមទឹក ប្រព័ន្ធស្រោចស្រពដំណក់ទឹក រោងបណ្តុះផ្សិត ទ្រុងមាន់ គ្រឿងចក្រ...... ដែលមានតំលៃ (ត្រូវកាត់រំលស់) ជាប្រចាំ ទោះជាមានការផលិត ឬក៏ គ្មានការផលិតក៏ដោយ ។ ដោយសារឧបករណ៍ និង សម្ភារៈ ក្នុងមុខចំណាយ*មិនប្រែប្រួល* ទាំងនេះ អាចប្រើបានច្រើនដង (ប្រើម្តងមិនអស់) ហើយ អាចប្រើនៅក្នុងផលិតកម្ម សារក្រោយៗ បានទៀតនោះ គេត្រូវគិតរំលស់វា ជាច្រើនសារ/ដង ។ ការកំណត់ចំនួនសាររំលស់ថ្លៃឧបករណ៍ និង សម្ភារៈ ក្នុងប្រភេទចំណាយថេរនេះ អាចគិតបានច្រើនបែប ដូចជា តាមចំនួនសារ (ដង) ផលិតកម្ម តាមអាយុកាល (រយៈពេល) អាចនៅប្រើបានរបស់វា ...... ។

* *មិនប្រែប្រួល* បានន័យថា៖ នៅពេលទិញ ឬ សាងសងហើយ (គឺថា បានចំណាយហើយ) នោះបីបានប្រើ ឬ មិនបានប្រើក្តី សម្រាប់ការផលិតទំនិញ(ផលិតផល)អ្វីមួយ ក៏ដោយ ក៏គុណភាព (គឺថា វាក្លាយបន្តិចម្តងៗ ទៅជារបស់ចាស់ សឹករេចរិល...... ) ហើយ តំលៃរបស់វា នឹងត្រូវធ្លាក់បង់បន្តិចម្តងៗ ទៅតាមនោះដែរ។

(២) ចំណាយប្រែប្រួល គឺជាប្រភេទចំណាយជាក់ស្តែងសម្រាប់ការផលិតមុខផលិតផល ឬ សេវាកម្មអ្វីមួយ។ ការចំណាយប្រភេទនេះ រួមមាន វត្ថុធាតុដើម ដូចជា គ្រាប់ពូជ ជី ថ្នាំ កំបោរស ការរៀបចំដី ថ្លៃបូមទឹកស្រោចស្រព ពលកម្ម...... ដែលត្រូវការ ចាំបាច់សម្រាប់ផលិតរបស់ ឬ ផលិតផលអ្វីមួយ (ដូចជា បន្លែ ផ្សិតចំបើង ពោត សណ្តែក មាន់ ជ្រូក......) ។

ដើម្បីឲ្យដឹងច្បាស់ ថាតើគោលដៅជោគជ័យជំនួញ សម្រេចបានត្រឹមណានោះ គេត្រូវការព័ត៌មានជាចាំបាច់ ដែលមិនអាចរកបាន ក្រៅពីការកត់ត្រាជាប្រចាំ និង បានត្រឹមត្រូវរបស់យើង នោះឡើយ ។ ការកត់ត្រា អាចផ្តោតលើ ការប្រមូលព័ត៌មានចាំបាច់ សម្រាប់វិភាគចំណាយ និង ចំណេញ និង តម្រង់ទិសមុខរបរ ឬ ផលិតកម្ម តាមពេលវេលា ឲ្យចំឆ្លើយតបតាមតម្រូវការទីផ្សារ និង ទៅអនាគតខាងមុខ ។ ខាងក្រោមនេះ ជាទម្រង់កត់ត្រាគំរូសាមញ្ញមួយ ដែលកសិករ (*អ្នកដាំបន្លែ*) អាចប្រើសម្រាប់កត់ត្រាចំណាយ ចំណូលរបស់ខ្លួន ។

ក. តារាងចំណាយ

| ឈ្មោះផលិតកម្ម:........................................<br>ថ្ងៃចាប់ផ្តើមផលិតកម្ម:.................................... | | | ថ្ងៃបញ្ចប់ផលិតកម្ម:........................ | | |
|---|---|---|---|---|---|
| **ល.រ** | **មុខចំណាយ** | **ឯកតា** | **ចំនួន** | **តំលៃ ១ឯកតា** | **ទឹកប្រាក់សរុប** |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |

ខ. តារាងចំណូល

| ឈ្មោះផលិតកម្ម:........................................<br>ថ្ងៃចាប់ផ្តើមផលិតកម្ម:.................................... | | | ថ្ងៃបញ្ចប់ផលិតកម្ម:........................ | | |
|---|---|---|---|---|---|
| **ល.រ** | **មុខចំណូល** | **ឯកតា** | **ចំនួន** | **តំលៃ ១ឯកតា** | **ទឹកប្រាក់សរុប** |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |

## ៦.២. តារាងគំរូ សម្រាប់វិភាគចំណាយចំណូលផលិតកម្មដំណាំបន្លែ

| | |
|---|---|
| កសិករៈ | នៅៈ |
| ដំណាំៈ *(ត្រសក់ទ្រើង)* | ពូជៈ |
| ថ្ងៃចាប់ផ្តើមៈ | ថ្ងៃប្រមូលផលៈ |
| ផ្ទៃដីៈ (ម៉ែត្រការ៉េ) | ចំនួនដើមៈ |

| បរិយាយ | ឯកត្តា | ចំនួន ឯកត្តា | តម្លៃ ១ ឯកត្តា | ទឹកប្រាក់ សរុប | ចំនួនសារ វិលស់ | ប្រាក់សរុប ១ រដូវ (រៀល) |
|---|---|---|---|---|---|---|
| **១-ចំណូល** | | | | | | |
| ក-ប្រាក់ចំណូលដែលលក់បាន | គីឡូក្រាម | | | | | |
| ខ-មិនមែនជាប្រាក់ចំណូល(ហូប) | គីឡូក្រាម | | | | | |
| | **ចំណូលសរុប** | A | | | | |
| **២ក-ចំណាយប្រែប្រួល** | | | | | | |
| កម្លាំងពលកម្ម (សរុប ១វគ្គដាំដុះ) | ថ្ងៃ (ឬ ម៉ោង) | | | | | |
| គ្រាប់ពូជ | កញ្ចប់ | | | | | |
| ជីគីមី | សរុបរួម | | | | | |
| ជីធម្មជាតិ | គីឡូក្រាម | | | | | |
| ជីទឹកជំនួយលូតលាស់ | កញ្ចប់ | | | | | |
| ថ្នាំកំចាត់ជម្ងឺផ្សិត | សរុបរួម | | | | | |
| ថ្នាំកំចាត់សត្វល្អិត | សរុបរួម | | | | | |
| ម៉ាស៊ីនបូមទឹក | ប្រេងដែលប្រើ | | | | | |
| អន្ទាក់ចាប់សត្វល្អិត | ឈុត | | | | | |
| | **សរុបចំណាយ ប្រែប្រួល (TVC)** | | | | | |
| *៣ក-ចំណេញ ធៀប ចំណាយប្រែប្រួល* | | | | | | |
| **២ខ-ចំណាយមិនប្រែប្រួល/ថេរ(ត្រូវវិលស់)** | | | | | | |
| កៅស៊ូប្លាស្ទិចគ្របដីរង | ម៉ែត្រ | | | | | |
| បង្គោលចំណារ/ទ្រើង | ដើម | | | | | |
| ខ្សែទ្រើង | គីឡូក្រាម | | | | | |
| ថាសបណ្តុះកូន | ថាស | | | | | |
| សំណាញ់ទ្រើង | ដុំ | | | | | |
| | **សរុបចំណាយមិនប្រែប្រួល ថេរ (TFC)** | | | | | |
| **២គ-ចំណាយសរុប** (TC = TVC+TFC ) | | | | | | TC |
| *៣ខ-ចំណេញ ធៀប ចំណាយសរុប* (TC) | | | | | | B |
| | | | | | | |
| **ថ្លៃដើម ១ គីឡូ (រៀល)** | | | | | | = TC / A |
| **ចំណេញ ១ គីឡូ (រៀល)** | | | | | | = B / A |

